ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី០៥ ខែមីនា ឆ្នាំ២០១០

# Military Deems Rocket Launches a Success

BY SAING SOENTHRITH
THE CAMBODIA DAILY

ROLEA BA'IER DISTRICT, Kompong Chhnang province - The Royal Cambodian Armed Forces yesterday conducted its first rocket test in over 10 years, launching 215 rockets at a site near the Kompong Chhnang provincial airport.

Minister of Defense Tea Banh, who presided over the exercise, told around 500 assembled military and civilian onlookers that the test launch had been successful.

"We did the rocket-fire military exercise to defend the nation," he said.

More than 400 RCAF trainee soldiers participated in the exercise, which represented the culmination of a two-month training period for soldiers across the armed forces. Mr Banh said the exercise was held to give these young soldiers more experience.

"We are focusing on providing more training for our RCAF forces on how to use BM-21 mobile rocket launchers, especially the frontline forces," he said.

In a speech yesterday at the Royal University of Phnom Penh, Prime Minister Hun Sen reiterated that the test-launch was a training exercise, not an example of Cambodia flexing its military might.

...ckets streak through the air yesterday morning during a test of BM-21 truck-mounted rocket launchers in Kampong Chhnang province ...tory page 30)

"I would like to say that this is not a show of military muscle, but a simple exercise so that we can be ready to protect the nation in case of invasion," the premier said.

Lieutenant General Eth Sareth, the commander of the exercise, said yesterday that only three rockets had misfired.

"Today we fired the rockets almost 100 percent accurately," he said.

Although a technical glitch led five rockets in one launcher to stall, they were successfully fired about 10 minutes later.

Colonel Phlun Sophanna, an RCAF trainer who studied in the Soviet Union, said he was now passing his knowledge of munitions down to the next generation of Cambodian soldiers, who trained for 90 days to learn to operate the BM-21s.

"I am training our next generation how to fire BM-21s, and it's good that they can now do it," he said.

RCAF Deputy Commander-in-Chief General Kun Kim also focused on the young trainee soldiers when assessing the exercise yesterday.

"The shooters of the BM-21 rocket launchers are young. They had training in how to fire, and now they have had success in their exercise," he said.

*(Additional reporting by Phorn Bopha)*

# យោធានិយាយថា ការបាញ់រ៉ុក្កែតសាកល្បង ទទួលបានជោគជ័យ

ដោយ សាំង សុទ្ធឫទ្ធិ
THE CAMBODIA DAILY

ស្រុករលាប្អៀរ ខេត្តកំពង់ឆ្នាំង - កាលពីម្សិលមិញ កងយោធពលខេមរភូមិន្ទបានធ្វើការសាកល្បងបាញ់រ៉ុក្កែតជាលើកទី១របស់ខ្លួននៅក្នុងរយៈពេលជាង១០ឆ្នាំកន្លងមកនេះ ដោយបាញ់គ្រាប់រ៉ុក្កែតចំនួន២១៥គ្រាប់នៅទីតាំងមួយជិតអាកាសយានដ្ឋានខេត្តកំពង់ឆ្នាំង ។

លោក ទៀ បាញ់ រដ្ឋមន្ត្រីក្រសួងការពារជាតិដែលបានធ្វើជាអធិបតីនៅពិធីសមយុទ្ធនេះបានប្រាប់យោធានិងអ្នកឈរមើលជាជនស៊ីវិលដែលបានជួបជុំគ្នាប្រហែល៥០០នាក់ថា ការបាញ់សាកល្បងនេះបានទទួលជោគជ័យ ។ លោកបានមានប្រសាសន៍ថា "យើងធ្វើសមយុទ្ធយោធាបាញ់រ៉ុក្កែតដើម្បីការពារជាតិ" ។

ទាហានដែលជាសិក្ខាកាមជាង៤០០នាក់បានចូលរួមនៅក្នុងការធ្វើសមយុទ្ធនេះ ដែលតំណាងឲ្យការបញ្ចប់វគ្គបណ្តុះបណ្តាលរយៈពេល២ខែសម្រាប់ទាហាននៅក្នុងកងកម្លាំងប្រដាប់អាវុធ ។ លោក ទៀ បាញ់ បានមានប្រសាសន៍ថា ការធ្វើសមយុទ្ធនេះត្រូវបានរៀបចំឡើងដើម្បីផ្តល់បទពិសោធន៍ថែមទៀតដល់ទាហានវ័យក្មេងទាំងនេះ ។ លោកបានមានប្រសាសន៍ថា "យើងកំពុងផ្តោតលើការផ្តល់ការបណ្តុះបណ្តាលថែមទៀតសម្រាប់កងយោធពលខេមរភូមិន្ទរបស់យើងអំពីរបៀបប្រើជើងទម្ររ៉ុក្កែតចល័ត BM-21 ជាពិសេសកងកម្លាំងនៅជួរមុខ" ។

នៅក្នុងសុន្ទរកថាកាលពីម្សិលមិញនៅសាកលវិទ្យាល័យភូមិន្ទភ្នំពេញ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានថ្លែងម្តងទៀតថា ការបាញ់សាកល្បងនេះគឺជាការធ្វើសមយុទ្ធ មិនមែនជាគំរូរបស់ប្រទេសកម្ពុជាក្នុងការបង្ហាញសាច់ដុំយោធារបស់ខ្លួននោះទេ ។

លោកនាយករដ្ឋមន្ត្រីបានមានប្រសាសន៍ថា "ខ្ញុំចង់និយាយថា នេះមិនមែនជាការបង្ហាញសាច់ដុំយោធាទេ ប៉ុន្តែជាការធ្វើសមយុទ្ធធម្មតាដើម្បីឲ្យយើងអាចត្រៀមខ្លួនការពារជាតិក្នុងករណីមានការឈ្លានពាន" ។

ឧត្តមសេនីយ៍ឯក អិត សារ៉េត មេបញ្ជាការសមយុទ្ធនេះបានមានប្រសាសន៍កាលពីម្សិលមិញថា មានរ៉ុក្កែតតែ៣គ្រាប់ប៉ុណ្ណោះដែលបាញ់មិនចេញ ។

លោកបានមានប្រសាសន៍ថា "ថ្ងៃនេះយើងបានបាញ់គ្រាប់រ៉ុក្កែតទាំងនេះបានចំគោលដៅស្ទើរតែ១០០ភាគរយ" ។

ទោះបីបញ្ហាបច្ចេកទេសបានធ្វើឲ្យរ៉ុក្កែតចំនួន៥នៅក្នុងជើងទម្រមួយមិនដំណើរការក៏ដោយ ក៏រ៉ុក្កែតទាំងនោះត្រូវបានបាញ់ដោយជោគជ័យដែរប្រហែល១០នាទីក្រោយមក ។

លោកវរសេនីយ៍ឯក ភ្លន់ សុផាណា ជាគ្រូបណ្តុះបណ្តាលរបស់កងយោធពលខេមរភូមិន្ទដែលបានសិក្សានៅសហភាពសូវៀតបានមានប្រសាសន៍ថា ឥឡូវនេះលោកកំពុងផ្ទេរចំណេះដឹងរបស់លោកអំពីគ្រាប់រំសេវទៅទាហានកម្ពុជាជំនាន់ក្រោយ ដែលបានបណ្តុះបណ្តាលអស់រយៈពេល៩០ថ្ងៃដើម្បីរៀនប្រើ BM-21 ។

លោកបានមានប្រសាសន៍ថា "ខ្ញុំកំពុងបណ្តុះបណ្តាលទាហានជំនាន់ក្រោយរបស់យើងអំពីរបៀបបាញ់ BM-21 ហើយជាការល្អដែលពួកគេអាចប្រើវាបានឥឡូវនេះ" ។

លោកឧត្តមសេនីយ៍ គន់ គីម អគ្គមេបញ្ជាការរងកងយោធពលខេមរភូមិន្ទក៏បានផ្តោតទៅលើទាហានដែលជាសិក្ខាកាមវ័យក្មេងៗទាំងនោះផងដែរ នៅពេលដែលលោកធ្វើការវាយតម្លៃអំពីការធ្វើសមយុទ្ធនេះកាលពីម្សិលមិញ ។

លោកបានមានប្រសាសន៍ថា "អ្នកបាញ់រ៉ុក្កែត BM-21 គឺនៅក្មេង ។ ពួកគេមានការបណ្តុះបណ្តាលអំពីរបៀបបាញ់ ហើយឥឡូវនេះពួកគេមានជោគជ័យនៅក្នុងការធ្វើសមយុទ្ធរបស់ខ្លួន" ៕

*(រាយការណ៍បន្ថែមដោយ ផន បុប្ផា)* H

# Lawyers Still Seeking New Judge in Keat Kolney Land Dispute

BY KUCH NAREN
THE CAMBODIA DAILY

Lawyers have filed a letter asking the Ratanakkiri Provincial Court to hasten the replacement of a judge for impeding the case of a land dispute between Jarai ethnic minority villagers and Keat Kolney, the sister of Finance Minister Keat Chhon, a lawyer and villagers said yesterday.

Four lawyers from Legal Aid of Cambodia and the Community Legal Education Center submitted the letter yesterday after arriving in the province earlier this week, CLEC defense lawyer Yin Savath said.

The letter asks the court director to act on a December complaint requesting to replace Judge Thor Saran. Their request for new judge followed three complaints sent to Judge Saran himself over his court's sluggishness in expediting the case between the villagers and the minister's sister.

"We lodged an objection letter reminding the court director to take action on our complaint [against] the judge," Mr Savath said. "We need a new judge to work on the villagers' civil complaint, which has been in dispute in court for years without resolution."

Ratanakkiri court Director Lou Sou Sambath said he had no knowledge of the December "challenge" to Judge Saran's fitness to preside over the case when he met with Mr Savath on Tuesday, according to the CLEC lawyer, who added that Mr Sambath nevertheless promised "to solve the complaint very soon."

Mr Sambath could not be reached for comment yesterday.

The flurry of complaints stem from a civil case filed by villagers from the ethnic Jarai minority against Ms Kolney in late 2007, in which they accuse her of seizing 450 hectares of rotational farmland for a rubber plantation in O'Yadaw district's Pate commune. So far, 250 hectares of the disputed land have been planted with rubber trees.

The villagers claim that Judge Saran is unwilling to solve the case and has delayed its progress through the court. The judge began investigating the dispute in September 2008, after each of the two judges who were involved in the case, An Samnang and Ya Narin, were transferred to posts outside the province.

Judge Saran was unavailable for comment yesterday, but his court clerk Chan Nimol said he had seen the group of lawyers at the court. The clerk also offered her opinion on the Ms Kolney land dispute case.

"I know the [Jarai] villagers prefer to end the matter and to withdraw the complaint," Ms Nimol said, "but there are different lawyers always working as defense lawyers for villagers and they pressure those minority people not to drop the complaint."

Contacted yesterday, however, local representatives of the villagers dismissed this account.

"All the complaints asking for a new judge as well as reminding the court to make the investigation process faster stem from the villagers' will," said Roman Hil, a Jarai villager representative.

Mr Saran has summoned villagers' representatives for questioning twice since late 2008, but otherwise has taken no action on the civil case, Mr Hil said.

# ក្រុមមេធាវីស្វះស្វែងឱ្យមានចៅក្រមថ្មីក្នុងរឿងក្តីជម្លោះដីធ្លីជាមួយអ្នកស្រី គាត កុលណី

ដោយ គុជ ណារ៉េន
THE CAMBODIA DAILY

មេធាវីម្នាក់និងក្រុមអ្នកភូមិបាននិយាយកាលពីម្សិលមិញថា ក្រុមមេធាវីបានដាក់លិខិតមួយច្បាប់ស្នើឲ្យតុលាការខេត្តរតនគិរីពន្លឿនការដាក់ជំនួសចៅក្រមសម្រាប់រឿងក្តីជម្លោះដីធ្លីមួយដែលអូសបន្លាយជាយូរមកហើយរវាងក្រុមអ្នកភូមិជនជាតិភាគតិចចារ៉ាយនិងអ្នកស្រី គាត កុលណី ប្អូនស្រីរបស់លោក គាត ឈន់ រដ្ឋមន្ត្រីក្រសួងហិរញ្ញវត្ថុ ។

លោក យិន សាវ៉ាត មេធាវីមកពីមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ ជាអង្គការជំនួយផ្នែកច្បាប់នៅកម្ពុជាបានមានប្រសាសន៍ថា មេធាវី៤រូបមកពីមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ ជាអង្គការជំនួយផ្នែកច្បាប់នៅកម្ពុជាបានដាក់ជូនលិខិតនេះកាលពីម្សិលមិញបន្ទាប់ពីមកដល់ខេត្តនេះកាលពីដើមសប្តាហ៍នេះ ។

លិខិតនេះស្នើឲ្យប្រធានតុលាការចាត់វិធានការចំពោះពាក្យបណ្តឹងកាលពីខែធ្នូដែលស្នើឲ្យមានការដាក់ជំនួសចៅក្រម ថោ សារ៉ន ។ សំណើរបស់ពួកគេឲ្យមានចៅក្រមថ្មីធ្វើឡើងបន្ទាប់ពីមានពាក្យបណ្តឹងចំនួន៣ដែលបានបញ្ជូនទៅលោកចៅក្រម ថោ សារ៉ន ខ្លួនឯងស្តីពីភាពយឺតយ៉ាវរបស់តុលាការលោកនៅក្នុងការពន្លឿនរឿងក្តីរវាងក្រុមអ្នកភូមិនិងប្អូនស្រីរបស់លោករដ្ឋមន្ត្រី ។

លោក យិន សាវ៉ាត បានមានប្រសាសន៍ថា "យើងបានដាក់លិខិតជំទាស់មួយដោយរំឭកប្រធានតុលាការឲ្យចាត់វិធានការទៅលើពាក្យបណ្តឹងរបស់យើងប្រឆាំងនឹងចៅក្រមរូបនេះ ។ យើងត្រូវការចៅក្រមថ្មីម្នាក់ដើម្បីធ្វើការលើពាក្យបណ្តឹងរដ្ឋប្បវេណីរបស់ក្រុមអ្នកភូមិដែលស្ថិតនៅក្នុងជម្លោះនៅក្នុងតុលាការអស់រយៈពេលជាយូរមកហើយដោយគ្មានដំណោះស្រាយ" ។

លោក លូ ស៊ូសម្បត្តិ ប្រធានតុលាការខេត្តរតនគិរីបានមានប្រសាសន៍ថា លោកមិនបានដឹងអំពីការតវ៉ាកាលពីខែធ្នូចំពោះលក្ខណៈសម្បត្តិរបស់ចៅក្រម ថោ សារ៉ន ក្នុងការធ្វើការជំនុំជម្រះលើរឿងក្តីនោះទេនៅពេលលោកជួបជាមួយ លោក យិន សាវ៉ាត កាលពីថ្ងៃអង្គារ នេះបើយោងតាមមេធាវីនៅមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ ជាអង្គការជំនួយផ្នែកច្បាប់នៅកម្ពុជាដែលបានបន្ថែមថា លោក លូ ស៊ូសម្បត្តិ បានសន្យាថា "នឹងដោះស្រាយពាក្យបណ្តឹងនេះក្នុងពេលឆាប់ៗ" ។

គេមិនអាចទាក់ទងលោក លូ ស៊ូសម្បត្តិ ដើម្បីសុំការអត្ថាធិប្បាយបានទេកាលពីម្សិលមិញ ។

ពាក្យបណ្តឹងទាំងនេះកើតចេញពីរឿងក្តីរដ្ឋប្បវេណីមួយដែលក្រុមអ្នកភូមិជនជាតិភាគតិចចារ៉ាយប្តឹងអ្នកស្រី គាត កុលណី កាលពីចុងឆ្នាំ២០០៧ ដែលក្នុងនោះពួកគាត់បានចោទប្រកាន់អ្នកស្រីថា បានរឹបអូសយកដីស្រែផ្លាស់វេនទំហំ៤៥០ហិកតាសម្រាប់ធ្វើចំការកៅស៊ូនៅក្នុងភូមិប៉ាតេ ស្រុកអូរយ៉ាដាវ ។

រហូតមកដល់ពេលនេះ ដីទំហំ២៥០ហិកតានៃដីដែលមានជម្លោះនេះត្រូវបានដាំដើមកៅស៊ូរួចហើយ ។

ក្រុមអ្នកភូមិបានអះអាងថា ចៅក្រម ថោ សារ៉ន គ្មានឆន្ទៈក្នុងការដោះស្រាយរឿងក្តីនេះទេ ហើយបានពន្យារដំណើរការរឿងក្តីនេះនៅក្នុងតុលាការ ។

ចៅក្រមរូបនេះបានចាប់ផ្តើមស៊ើបអង្កេតជម្លោះនេះកាលពីខែកញ្ញាឆ្នាំ២០០៨ បន្ទាប់ពីចៅក្រមពីររូបដែលពាក់ព័ន្ធនៅក្នុងរឿងក្តីនេះគឺលោក អាន សំណាង និងលោក យ៉ា ណារិន ត្រូវបានផ្ទេរទៅកាន់តំណែងនៅខេត្តផ្សេង ។

គេមិនអាចទាក់ទងចៅក្រម ថោ សារ៉ន ដើម្បីសុំសេចក្តីអត្ថាធិប្បាយបានទេកាលពីម្សិលមិញ ប៉ុន្តែលោកស្រី ចាន់ និមល ក្រឡាបញ្ជីរបស់លោក ថោ សារ៉ន បានមានប្រសាសន៍ថា គាត់បានឃើញមេធាវីមួយក្រុមនៅតុលាការ ។ ក្រឡាបញ្ជីរូបនេះក៏បានផ្តល់នូវទស្សនៈរបស់គាត់ស្តីពីរឿងក្តីជម្លោះដីធ្លីជាមួយអ្នកស្រី គាត កុលណី ផងដែរ ។

លោកស្រី ចាន់ និមល បាននិយាយថា "ខ្ញុំដឹងថា ក្រុមអ្នកភូមិជនជាតិភាគតិចចារ៉ាយចង់បញ្ចប់បញ្ហានេះនិងចង់ដកពាក្យបណ្តឹងវិញ ប៉ុន្តែមានមេធាវីផ្សេងៗគ្នាដែលតែងតែធ្វើជាមេធាវីការពារឲ្យក្រុមអ្នកភូមិហើយពួកគេគាបសង្កត់អ្នកភូមិជនជាតិភាគតិចទាំងនោះមិនឲ្យដកពាក្យបណ្តឹង ។ ទោះជាយ៉ាងណា ដោយត្រូវបានទាក់ទងកាលពីម្សិលមិញតំណាងរបស់អ្នកភូមិក្នុងមូលដ្ឋានបានច្រានចោលការរៀបរាប់ទាំងនេះ ។

លោក រ៉ូម៉ាំ ហ៊ីល តំណាងអ្នកភូមិជនជាតិភាគតិចចារ៉ាយបាននិយាយថា "ពាក្យបណ្តឹងទាំងអស់ដែលស្នើសុំចៅក្រមថ្មីម្នាក់ក៏ដូចជារំឭកតុលាការឲ្យធ្វើការស៊ើបអង្កេតឲ្យបានឆាប់គឺផ្តើមចេញពីឆន្ទៈរបស់ក្រុមអ្នកភូមិ" ។

លោក រ៉ូម៉ាំ ហ៊ីល បាននិយាយថា លោក ថោ សារ៉ន បានកោះហៅតំណាងក្រុមអ្នកភូមិមកសាកសួរពីរលើកចាប់តាំងពីចុងឆ្នាំ២០០៨ ប៉ុន្តែមិនបានចាត់វិធានការលើរឿងក្តីរដ្ឋប្បវេណីនេះទេ ៕L

តមកទំព័រទី ០៥

# តើសព្វថ្ងៃអ្នកណាជាម្ចាស់...

**សេចក្តីសន្និដ្ឋាន :** ចម្លើយ និងការពន្យល់បំភ្លឺដល់ក្មួយ សុង និងជាការក្រើនរំឭកដល់ជនជាតិរួមឈាមខ្មែរទាំងអស់ឱ្យបានយល់ និងភ្ញាក់រឭកក្រោកឈរឡើងសាមគ្គីគ្នាជួយស្រោចស្រង់ប្រទេស និងជនជាតិខ្មែរកម្ពុជា កុំឱ្យបាត់បង់អត្តសញ្ញាណ ជាតិសាសន៍ខ្មែរ និងឱ្យបានធ្វើជាម្ចាស់កម្មសិទ្ធិពិតប្រាកដលើទឹកដីកម្ពុជា ជារៀងរហូតតទៅបាន ។

ប្រទេសកម្ពុជាសព្វថ្ងៃកំពុងតែស្ថិតនៅក្រោមការត្រួតត្រារបស់រដ្ឋាភិបាលយួន វៀតណាមសង្គមនិយម ពុំមែនក្រោមការត្រួតត្រារបស់នាយករដ្ឋមន្ត្រីដែលមានអំណាចជាអធិរាជកំពូល និងជាមហាឧត្តមសេនីយ៍កងទ័ពខ្មែរកំពូលនោះទេ ៕

**សេចក្តីបញ្ជាក់ :** ក្មួយ សុង មានភរិយាឈ្មោះ គីម នឿន មានលេខទូរស័ព្ទ : ២១៥-៩២៤-៥០៨១ ។

# ហឹង្សានៅសាលាហ្វីឡាដែលហៀវខាងត្បូងសេចក្ដីរាយការណ៍គួរឱ្យតក់ស្លុត

•••ក្ដីសេចក្ដីរាយការណ៍ ៣១ទំព័រ របស់ចៅក្រម ជេម ធី ជីល ដែលចេញផ្សាយជាសាធារណៈ កាលពីថ្ងៃទី២៣ ខែកុម្ភៈ ឆ្នាំ២០១០ កន្លងទៅស្ដីពីការវាយតបលើសិស្សអាស៊ី ចិន និងយួន នៅសាលាហ្វីឡាខាងត្បូង កាលពីថ្ងៃទី៣ ខែធ្នូ បានសរសេរថា "ស្ដ្រីខ្មែរម្នាក់ បានផ្ដើមវាយមុនគេ ហើយបានបង្ហាញនូវភាពកាចសាហាវជាងគេ..." ។

នៅក្នុងសេចក្ដីរាយការណ៍ ដែលរំលឹកដល់សកម្មភាពហឹង្សារបស់ស្ដ្រីវ័យក្មេងខ្មែរ នោះជាច្រើនដង បានធ្វើឱ្យមាតាបិតានៃសហគមន៍គ្រប់ពណ៌សម្បុរភ្ញាក់ផ្អើលជាខ្លាំង ។ ចៅក្រម "ជេម" បានចង្អុលពីអំពើហឹង្សានៃពូជសាសន៍ខុសគ្នា ដែលម្ខាងមានក្រុមស្បែកខ្មៅភាគច្រើន ហើយក៏មានខ្មែរ និងយុវជនស្បែកសដែរ ហើយម្ខាងទៀតមានសិស្សចិន និងយួនប្រមាណ ១០០នាក់ បានទទួលការវាយតបយ៉ាងកាចសាហាវពីក្រុមទី១ ។ ការប្រទូសរ៉ាយនេះ បានផ្ដើមឡើងនៅថ្ងៃទី២ ខែធ្នូ (មុន១ថ្ងៃ) មានការឈ្លោះគ្នារវាងក្រុមអាស៊ី និងក្រុមអាមេរិកាំង ស្បែកខ្មៅ នៅជ្រុងផ្លូវ "ប្រ៊ត" និង "ស្នាយដឺរ" បណ្ដាលឱ្យសិស្សពិការស្បែកខ្មៅម្នាក់រងគ្រោះ ។ ស្អែកឡើងនៅក្នុងសាលាក្រុមស្បែកខ្មៅ បានទៅរុករកមុខសិស្សអាស៊ីតាមថ្នាក់ ដើម្បីសងសឹក -មានការលើកគ្នាមកវាយសិស្សអាស៊ីតាមផ្លូវទៅថ្នាក់រៀន តាមអាហារដ្ឋានសាលា ។ អ្នកគ្រូ "ឡសុន" បានចេញមុខការពារ ដោយរងការវាយប្រហារលើសិស្ស អាស៊ីតែម្នាក់ឯង - ពុំមានឃើញសញ្ញានៃការខិតខំទប់ស្កាត់ការវាយតបគ្នាក្រៅពីអ្នកគ្រូ "ឡសុន" ទេ ទោះជាក្រុមអ្នកធ្វើការនៅអាហារដ្ឋានក៏ដូចជា នាយកសាលា "ឡាក្រេតា ប្រោឥន" ក៏ដោយ ។ ចៅក្រម "ជេម" បានសរសេរថា ការវាយគ្នានេះ មានការរៀបចំ ហើយគ្រោងទុកជាមុន ហើយសិស្សអាស៊ីមានការភ័យខ្លាច ហើយបានសុំឱ្យមានការជូនសិស្សទៅផ្ទះពេលចេញពីសាលាវិញ" ។

សេចក្ដីរាយការណ៍បានបញ្ជាក់ថា "មានការប្រកាន់ពណ៌សម្បុរស្បែក តែពុំអាចបញ្ជាក់ឱ្យបានច្បាស់លាស់ថា ការវាយប្រហារនេះ ដោយសារតែក្រុមអាស៊ីជាជនអន្តោប្រវេសន៍ " ។




On Wednesday, December 13th, 2009, Students from South Philly High told the School Reform Commission what they think.

នៅវិទ្យាល័យហ្វីឡាដែលហៀវខាងត្បូងនេះ មានប្រវត្តិទទួលបណ្ដឹងអំពើហឹង្សាយ៉ាងវែងលើសិស្សអន្តោប្រវេសន៍ តែក្រុមប៉ូលិសការពារសន្តិសុខបានរាយការណ៍ថា វិទ្យាល័យមួយនេះ មានជាប់ទាក់ទងនឹងក្រុម "ជនពាល" ផងដែរ ។

ក្រុមមាតាបិតាសិស្សអាស៊ី បានដាក់ពាក្យប្ដឹងសាលារៀន ចេញពី "ឆាយណាថោន" ស្ដីអំពីការមិនយកចិត្តទុកដាក់ បណ្ដាលឱ្យមានគ្រោះថ្នាក់ទៅតុលាការ ហើយសេចក្ដីរាយការណ៍នេះ អាចនឹងត្រូវគេបកស្រាយថា ជាជម្លោះរវាងសិស្សអាស៊ី និងសិស្សអាស៊ីគ្នាឯងទៅវិញបាន ។ ក្រុមមាតាបិតាខ្មែរធ្លាប់និយាយថា "បញ្ហាកូនសិស្សស្បែកខ្មៅវាយលើកូនខ្មែរនេះ ក៏មានជារឿយៗ តាំងពីច្រើនឆ្នាំមក ហើយ បណ្ដាលឱ្យកូនខ្លួនខ្លាចការទៅរៀនជាខ្លាំង នៅហ្វីឡាដែលហៀវនេះ តែពុំដែលមានអាជ្ញាធរណា ឬអង្គការណាយកចិត្តទុកដាក់នោះទេ" - កាលពីឆ្នាំមុន ក្រុមដដែលនេះ បានថ្លែងប្រាប់សាលាក្រុង អំពីកង្វល់សន្តិសុខកូនសិស្សខ្មែរដែរ តែពុំមានទទួលចម្លើយណាមួយមកវិញទេ ។

ព្រឹត្តិការណ៍ដែលកើតឡើងបណ្ដាលឱ្យរបួសសិស្សចិន និងយួនច្រើននាក់ នាចន្លោះថ្ងៃទី២ និងទី៣ ខែធ្នូ ឆ្នាំ២០០៩ នោះ បាននាំឱ្យមានសេចក្ដីសម្រេចឱ្យសិស្ស ២២ រូប ត្រូវព្យួរជើង ហើយខ្លះទៀតត្រូវបណ្ដេញចេញពីសាលា ហើយខ្លះទៀតត្រូវទទួលការចោទប្រកាន់ពីតុលាការពីបទឧក្រិដ្ឋទៀតផង ៕

-ខ្មែរប៉ុស្ដិ៍-

# ពាណិជ្ជកម្មនាំចេញខ្មែរមានឪនភាព



ដោយ : ដាណាលី

•••នាឆ្នាំ២០០៩ សេចក្ដីរាយការណ៍ពីការនាំសម្លៀកបំពាក់ចេញទៅក្រៅបានតិចជាងឆ្នាំមុនៗ ដែលទទួលកំរៃបាន២.៦ពាន់លានទល់នឹង៣ពាន់១លានកាលពីឆ្នាំ២០០៩ ។ ដូចគ្នានឹងការនាំសម្លៀកបំពាក់ចូលមកសហរដ្ឋអាមេរិកបានកំរៃ១.៥ពាន់លានដុល្លារ នៅឆ្នាំ២០០៩ ដល់២ពាន់លានដុល្លារកាលពីឆ្នាំ ២០០៨។

ការធ្លាក់ចុះប្រាក់ចំណូលពីការនាំចេញនៅកម្ពុជាបានត្រូវគេឃើញកើនការនាំចេញទៅប្រទេសផ្សេងប្រមាណ២៣៣លានដុល្លារ ដាណាលី ធ្វើសេចក្ដីរាយការណ៍ជាភាសាអង់គ្លេសដូចតទៅនេះ :

Writer: Dannaly Sam
The Khmer Post

PHNOM PENH – Exports of garments from Cambodia have decreased in 2009 with a profit of only 2.6 billion dollars in comparison with 3.1 billion dollars in 2008, as cited by Xinhua General News Service from the Commerce Ministry on February 23, 2010.

Cambodia's garment export reached the United States in 2009 with 1.5 billion dollars in comparison with close to 2 billion dollars in 2008.

The reported released by the Commerce Ministry also stated that the garment export to the European Union also decreased by sixty-eight billion dollars from 2008 in 2009.

With drops in Cambodian garment exports to countries in Europe, the U.S., and Canada, there has been a jump in exports to other countries in Asia with a jump in 233 million dollars in 2009 versus the 178 million dollars in 2008.

# HONG KONG

## SUPERMARKET

## FAMER´S BEST






$1.69/can




$3.49 each

**Newly Renovated.**
**Added new section .**
**Clean and Improved management !**

ទើបនឹងកែលំអរថ្មីឡើងវិញ
-បន្ថែមផ្នែកលក់ថ្មីទៀត
ហាងស្អាត ហើយបង្កើន
គុណភាពគ្រប់គ្រង

**Weekly Sale**
លក់ចុះថ្លៃរៀងរាល់សប្តាហ៍




$2.99/bag




$7.99



$2.99






$6.99/box




$1.29/can



$2.49/28oz



$2.49/bag




2 for $3



$4.99 / lb

**OPEN 7 DAY**
**8:00 - 9:00**

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-7281300 Fax: 215-728-1600

- ចំណាយ **$140**ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ **$100**ដុល្លារ ទទួលបាននូវភេសជ្ជៈ ឬទឹកញ្ចប់មួយប្រអប់ (តម្លៃ **8.99**)
- ចំណាយ **$25** ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

# THE KHMER POST
## EAST COAST
THE INDEPENDENT CAMBODIAN NEWS

Proudly Celebrating

## THE WORLD PRESS FREEDOM DAY

(Declared by United Nations General Assembly on May 3rd, 1993 under Article 19 of Universal Declaration of Human Rights)

To promotes the importance of freedomof the press as a basic human right to freedom of expression, through lobbying and monitoring activities. It recognizes the media independence and pluralism is the essential to the process of democracy byproviding advisory services on media legislation and byremindinggovernments,parliamentarians and other decision-makers awareof the need to guarantee free expression.

**Please join us at the New Golden Palace**
801 Washington Avenue. Philadelphia, Pa 19147
Sunday May 9th, 2010
4 p.m. – 8 p.m.
Dinner will be served.
You will learn about current Press expression in Cambodia and how you can use the Cambodian media from aboard to influence your local, national, and inte,rnational communities through mass communication.
Advance Registration $20.00
Door Admission: $25.00

Please call 267-253-3947/267-253-8758 or Email: khmerpostusa@gmail.com to register.

តមកពីទំព័រទី ០៦

## រញ្ជួយផែនដីនៅហៃទី...

where money is tight, teens are able to show their support and passion. Internet communities have made it a point to help fund relief work. The media has made great efforts to emphasize the importance of relief work, fundraising, and coming together as communities.

Students across the Philadelphia area have been making efforts to help recent victims and cities of natural disasters. At my school, Haverford High School, students from all walks of life immediately formed a relief group to help Haiti. Natural disasters have brought together many people who would, most likely, not have found common ground before. Celebrities have gone to Haiti and Chile in an effort to raise awareness and to help the people of those respective countries. "*We Are the World,*" a Michael Jackson classic, has been remade by artists of all genres to raise money for Haiti relief.

Natural disasters occur everyday, but not as cruel as the most recent earthquakes that have rocked and broken the homes of many. It is urgent and of utmost importance that students, parents, family, adults and strangers help those in need. Putting spare change into a donation box is more than just slipping a coin through a slot. It is an act of complete selflessness and kindness.

"One of my friends, Kiara Torres, has done everything possible to help donate for Haiti. She's actually hurt because Haiti is so close to the Dominican Republic, where she has family." –Linda Son

ឌឹ ខេមបូឌា ដេលី The Cambodia Daily

# Hun Sen Denounces Vice, Calls Out Police

BY PHORN BOPHA
THE CAMBODIA DAILY

Prime Minister Hun Sen called for a crackdown on prostitution and gambling during a speech yesterday at the Royal University of Phnom Penh.

Prostitution would only increase if authorities did not take proper action, he said.

"Prostitution is still a problem that causes concern, as women and children are being smuggled," the premier said. "It is still a concern as there are still bloodsuckers out there who are taking advantage of women, and that is why keep fighting this vicious group."

The premier appealed to provincial and district authorities to be aware of prostitution at hotels and entertainment clubs in their jurisdiction.

The heads of trafficking or prostitution organizations would not be safe from punishment, Mr Hun Sen warned, adding that officials caught interfering in sex-trafficking cases would lose their ranks.

The US State Department in June downgraded Cambodia on its ranking of countries' efforts to combat human trafficking, saying the government had not shown evidence of convicting and punishing those suspected of involvement, and alleging that corrupt police and courts allowed the problem to persist.

Thun Saray, president of the human rights organization Adhoc, said yesterday that he welcomed the premier's remarks but hoped any government response would be sustained.

"It works whenever he talks about it, but later on the problem turns to be the same," said Mr Saray. "I think authorities should always carry this out."

In his speech, Mr Hun Sen also warned local authorities, specifically the police chief and military police chief of Phnom Penh municipality, to be more vigilant when cracking down on gambling.

"I want all of the cases reviewed," he said. "You don't know [of gambling establishments] or you do and they are still there."

Phnom Penh police chief Touch Naruth hung up when contacted by a reporter. Military police officials could not be reached.

Mr Hun Sen also specifically asked teachers to report suspicious student behavior related to gambling and prostitution to the government.

Tell us "where [students] are going if they are not attending school and you see them going to entertainment clubs or hotels while holding hands," Mr Hun Sen said.

# Little Agreement Over Land Dispute at Mondolkiri Meeting

BY KUCH NAREN
THE CAMBODIA DAILY

More than 30 Banong ethnic minority villagers failed to agree yesterday with a local official in Mondolkiri province's Busra commune over a land dispute concerning more than 2,000 hectares of rotational farmland, villagers and the local official said.

On Wednesday, commune chief Keng Nhak summoned nine villagers to the commune office in Preach Chreada district over allegations made against him at a Feb 25 public forum organized by the Cambodian Center for Human Rights that claimed he had signed paperwork to sell indigenous peoples' land to the rubber company Sofin KCD.

Mr Nhak has denied the allegations

"During the meeting, Mr Nhak ordered people to report to him before leaving [the province] to take part in a planned trip or training course organized by a rights group," said a villager present at yesterday's meeting who only gave her name as Sary, 39.

Though each of the protesting families had received between $78 and $750 in compensation from Sofin KCD depending on the size of their farmland, the villagers contend the payment was either too little or did not extend to all of their land.

"Each Banong family has at least three separate plots of rotation farmland," said a villager, who gave her name as Ny for fear of retribution.

"We absolutely discouraged and argued with the commune chief who claimed that the plots of rotational farmland that had already been cleared were state property," she said, adding the commune chief said they would not be paid more compensation for their loss.

Contacted by telephone yesterday, Mr Nhak said he would speak to officials at Sofin KCD and ask them to meet with villagers to discuss a compensation deal for the remaining families who had not yet agreed to accept any payment.

Mr Nhak confirmed that he had asked villagers at the meeting to keep him informed of their participation at events organized by NGOs, but said it was for their own safety.

"I do not ban them from taking part in the meeting organized by non-governmental organizations," he stressed. "I just want to make sure that my people are in a safe place."

# Thais Ask for 17,000 Cambodian Migrants To Replace Deportees

BY ABBY SEIFF
AND NEOU VANNARIN
THE CAMBODIA DAILY

Nearly 20,000 Cambodian workers are lined up to replace the 20,000 to 30,000 in danger of being deported from Thailand after failing to meet Tuesday's registration deadline for a work permit, Thai officials and rights workers said yesterday.

"We have 17,000 fresh workers [from Cambodia] to come in and replace those workers" who will be deported, said Supat Guukhun, deputy director-general of Thailand's Employment Department.

"We've sent the order to Cambodia for them to come work," he added, noting that little paperwork remains to be completed by the workers before they arrive. In addition to the 17,000 Cambodians requested, he said, Thailand has also asked for 10,000 workers from Laos and 11,000 from Burma.

Cambodian Foreign Ministry spokesman Koy Kuong said he did not know offhand whether there was an agreement to replace deported workers but defended Thailand's right to implement a registration process as it saw fit.

"They implement their immigration law—it is no problem. It is their internal law," he said, adding that Cambodia has been working closely with Thailand to ensure the verification goes smoothly.

Andy Hall, director of the Bangkok-based Human Rights and Development Foundation's Migrant Justice Program, called the plan "not thought out, not realistic."

"It sounds bizarre.... There is a formal process for bringing people into Thailand, and it is so expensive and complex [for companies], no one ever does it," he said.

Mr Hall noted this claim of "workers in the wings" has been employed for months by Thai officials as a mechanism to threaten workers into undertaking the unwieldy national verification process—a new policy aimed at improving the ability of both Thailand and the sending countries to keep track of migrants.

Regardless of the impending deportations, he and other rights workers noted the verification process would likely not make a dent in illegal crossings.

"There are a lot of illegal [migrants] crossing the border and being sent back," said Soun Chankea, Banteay Meanchey provincial coordinator for Adhoc. "It has become the culture here."

# ខ្មែរមានពូជ

ព្រះសង្ឃព្រះនាម ងិន ភេន, លោកវេជ្ជបណ្ឌិត ស៊ុយ ស៊ាងហេង, លោក ឌី សារ៉េត និង លោក ឆាយ សេរីវុឌ្ឍ បានបញ្ចប់កិច្ចពិភាក្សានៅពេលនេះ ដោយបានចងក្រងជាសៀវភៅមួយក្បាល ជាស្នាដៃសរសេរសម្រាប់ជាការអានជាសាធារណៈ ។ លើកក្រោយយើងសូមជូនស្នាដៃស្នេរម្នាក់ទៀត ដែលសិតសំរាំងអត្ថបទខ្លួនឈ្មោះ "អាចិកំបាំង និងសិល្បៈនៃជីវិត" **ដោយលោក ម៉ៅ ច័ន្ទសំណុំ ។**

*●វាគ្មិនបួនរូប បានរៀបចំសិក្ខាសាលាមួយនៅវត្តពោធិវង្សនៃប្រទេសបារាំង ដើម្បីសិក្សារកឫសគល់ដែលចេះតែនាំឱ្យខ្មែរឱនភាពផ្នែកស្មារតីតាំងពីបន្ទាប់សម័យអង្គរមក ។ ចំណោមអ្នកទាំង បួននោះ ក៏មានព្រះសង្ឃមួយអង្គផងដែរ ព្រះនាម ងិន ភេន, លោក វេជ្ជបណ្ឌិត ស៊ុយ ស៊ាងហេង, លោក ឌី ការ៉េត និង លោក ចាយ សេរីវុឌ្ឍ កាលពីថ្ងៃទី ២៦ ខែមេសា ឆ្នាំ២០០៩ ។*



### ចាយ សិរីវុឌ្ឍ

•••វត្តជាទីសក្ការៈយ៉ាងសន្ធឹកសន្ធាប់ យកទៅប្រទេសសៀម ។ ស្តេចខ្មែរព្រះនាមពញាយ៉ាត បានឡើងកាន់អំណាចនៅទីក្រុងអង្គរ បន្ទាប់ពីបានបណ្តេញសៀមអស់ហើយ លើកព្រះរាជធានីមកតាំងនៅទីក្រុងលង្វែកវិញ ។

បើតាមឯកសាររបស់លោក ហ្សរ៍ក ម៉ាស្ពេរ៉ូ (Georges Maspéro) គឺពេលបែកទីក្រុងអង្គរ ប្រទេសកម្ពុជា បានចុះចាញ់គេ និងត្រូវខូចខាតខ្ទេចខ្ទីជាខ្លាំង (បដិវត្តន៍ ឬវិបត្តិផ្ទៃក្នុងក៏មានទៅមែន) ថ្វីត្បិតតែគ្មានឯកសារប្រវត្តិសាស្ត្រណាបញ្ជាក់ច្បាស់លាស់ក្តី ។ លោកបានបញ្ជាក់ទៀតថា នេះជាការសន្និដ្ឋាន ឬក៏ជាការសន្មត់តែប៉ុណ្ណោះ ព្រោះស្តេចខ្មែរ ឥតបានបោះបង់ទីក្រុងអង្គរទេ ដោយគ្រាន់តែយល់ថា ព្រះអង្គមិនអាចយកទីក្រុងអង្គរ មកធ្វើជាព្រះរាជធានីនៃប្រទេសកម្ពុជាទៀតទេ ។

**សេចក្តីបញ្ជាក់**

នាឆ្នាំ១៩៩៥ លោក ក្រែក ឡូកាដ (Craig A. Lockard)[99] បានស្រាវជ្រាវឃើញច្បាស់ថា ប្រជាជនខ្មែរ ដែលបានមកស្ថិតនៅក្នុងភូមិភាគយើងសព្វថ្ងៃនេះ ចាប់តាំងពី ១.៥០០ ឆ្នាំមុនមកម្ល៉េះ គឺមុនគ្រិស្តសករាជ និងមុនជនជាតិឯទៀតៗទាំងអស់ ។

[99] - Integrating Southeast Asia the frame-work of work History : The Period before 1500, by Craig A. Lockard, in The History Teacher, Vol 29, No1, (Nov.1995, pp. 7-35.

ប្រជាជនខ្មែរ បានរៀបចំប្រទេសស្របទៅតាមអារ្យធម៌របស់ខ្លួន សូម្បីតែអ្នកដំណើរបរទេស ក៏មានការកោតសរសើរពីទំនៀមទំលាប់ ប្រពៃណី វប្បធម៌ ដែលមានស្ត្រីខ្មែរជួយប្រឈមមុខយ៉ាងរឹងមាំ ដើម្បីការពាររក្សាទុកឱ្យដល់កូនចៅជំនាន់ក្រោយទៀត ។

ខ្ញុំផ្ទាល់យល់ឃើញថា បើពេលណាខ្មែរយើងបាត់អារ្យធម៌ ពេលនោះហើយដែលខ្មែរយើងបាត់ពូជរលាយចូលជាតិដទៃ ឬទៅជាជនអនាថា រត់រកជំរកគ្រប់ទីកន្លែង ដើម្បីនឹងរស់រានមានជីវិតនឹងគេ ដោយមិនបានយល់ច្បាស់ថា ខ្លួនជាជនជាតិខ្មែរ ឬក៏ជាសាសន៍អ្វីទៀតផង ។ សូមបងប្អូនខ្មែរយើងភ្ញាក់រឭកឡើង ៕



### លោក ស៊ុយ ស៊ាងហេង
### ឧមត្ថ រតនត្តយស្ស

••• នៅក្នុងសហគ្រាសធំៗ មានខ្មែរជាច្រើនកាន់ការសំខាន់ៗ បើខ្មែរអន់ ហេតុអ្វីក៏អាចធ្វើការទាំងនេះកើត ? តើហេតុអ្វីបានជាខ្មែរយ៉ាប់រហូតតាំងពីសតវត្សទី១៤ មកងើបមុខមិនរួចសោះ ? តើមកពីថ្នាក់ដឹកនាំ ឬមកពីថ្នាក់ក្រោម ឬក៏មកពីហេតុអ្វីផ្សេងទៀត ។

**៥~ សម្បត្តិធម្មជាតិ** : ដីមានជីជាតិ បឹង ទន្លេ សមុទ្រសម្បូរត្រី ព្រៃឈើអាចផ្តល់ចំណីអាហារ និងបរិក្ខារយ៉ាងបរិបូរ ។

**៦~ ព្រះពុទ្ធសាសនា** : ចាស់បុរាណខ្មែរបានប្រមានថា ប្រយ័ត្ន ! ថ្វាយបង្គំព្រះប៉ះស៊ីម៉ង់តិ៍ ថ្វាយបង្គំព្រះសង្ឃប៉ះកូនអ្នកស្រុក ។

បើលោកអ្នកទៅវត្ត ហើយបែរទៅថ្វាយបង្គំស៊ីម៉ង់តិ៍ទៅវិញ តើកំហុសនេះធ្លាក់ទៅលើអ្នកណា? ធ្លាក់លើកសិស្ស ឬធ្លាក់លើលោកគ្រូ ? សូមមេត្តាសាកពិចារណាមើលផងចុះ ។ ក្នុងព្រះពុទ្ធដីកា (តារាងខាងក្រោមនេះ) យើងមិនឃើញពិធីសូត្រលើករាសី ចងខ្សែចំរើនអាយុ ស្រោចទឹក ។ល។ ឯណោះសោះ ។ ហេតុដូចម្តេចក៏មានពិធីនេះ ? មួយវិញទៀត ពុទ្ធមាមកៈទាំងអស់ធ្លាប់សូត្រយ៉ាងរត់មាត់ថា នត្ថិ មេ សរណំ អញ្ញំ ពុទ្ធោ...[90] មិនដែលខានទេ ។ តើសូត្រឱ្យអ្នកណាស្តាប់ ? អ្នកដែលបានចូលមកជិត ដើម្បីរកមើលកិច្ចបដិបត្តិខាងព្រះពុទ្ធសាសនា តើគេនឹងយល់យ៉ាងណាទេ បើគេព្នខុសពីឃើញរបៀបនេះ ? តើការប្រតិបត្តិបែបនេះ នឹងហុចផលយ៉ាងណាដល់សង្គម និងសាសនាយើង ដែលជាកត្តាមួយអាចជួយជ្រោមជ្រែងបានមួយភាគធំដល់សក្តានុពលកូនខ្មែរ **"ខ្មែរមានពូជ"** ទៅអនាគត ? យើងគួរនាំគ្នាសិក្សា ដើម្បីប្រតិបត្តិសាសនាយើងឱ្យបានត្រឹមត្រូវហ្មត់ចត់តាមព្រះធម្មវិន័យ ដែលយើងកោតសរសើរមិនដាច់ពីមាត់ ។

[90] - ពុទ្ធមាមកៈ = អ្នកកាន់ពុទ្ធសាសនាធ្លាប់សូត្រ នត្ថិ មេ សរណំ អញ្ញំ ពុទ្ធោ មេ សរណំ វរំ ដែលប្រែថា វត្ថុដទៃជាទីពឹង ទីរឭកនៃខ្ញុំព្រះករុណាមិនមានឡើយ មានតែព្រះពុទ្ធជាម្ចាស់ ជាទីពឹងទីរឭកដ៏ប្រសើររបស់ខ្ញុំព្រះករុណា ។

**ព្រះសិទ្ធត្ថគោតម[91] ជាគ្រូដើមនៃយើងបានទូន្មានថា :**

**សេចក្តីបញ្ចប់** : សង្កេតឃើញហេតុផលទាំងនេះហើយ ចិត្តខ្មែរយើងត្រូវតែរីករាយ ជួយអរសាទរដោយមោទនភាព[93] និងក្តីសង្ឃឹម, ខ្មែរគ្រប់វ័យ គួរខំប្រឹងខ្លួនឯងផង និងឈឺឆ្អាលដល់បងប្អូនយើងដែលមានសក្តានុពល តែខ្វះមធ្យោបាយគួរយើងជួយឱ្យមានមធ្យោបាយ ដើម្បីជម្រុញសង្គមខ្មែរយើងឱ្យរើបម្រះចេញពីងងឹតទៅរកភ្លឺ គឺឈោងយកកិត្យានុភាព[94]ជាតិឱ្យបានមកវិញ ។

[91] - សិទ្ធត្ថគោតម (សិតថាត់ថ:គោដំ), គោតម ជានាមត្រកូល ឯសិទ្ធត្ថ ជានាមខ្លួន ។ ពុទ្ធជាសាធារណនាម, មានន័យថា អ្នកត្រាស់ដឹងធម៌ពិត គឺអរិយសច្ចទាំង ៤ ជាដើម ។

[92] - សីល ៥ ឬ និច្ចសីល = វៀរចាក ១-សម្លាប់សត្វ, ២- យកទ្រព្យអ្នកដទៃ ដែលមិនបានឱ្យដោយកាយ ឬដោយវាចា, ៣- ប្រព្រឹត្តខុសក្នុងកាម, ៤- ពោលពាក្យកុហក, ៥- បរិភោគគ្រឿងស្រវឹង គឺសុរា និងមេរ័យ ។ គឺជាចរិយាធម៌ដែលត្រូវជៀសវាងរហូត ។

[93] - មោទនភាព ចិត្តត្រេកអរ ជួយរីករាយនិងផលល្អ ។ គឺត្រេកអរសាទរជាមួយគ្នា ។

ខ្មែរយើងត្រូវការឧត្តមគតិតែមួយ គឺយើងមានវត្ថុធាតុដើមជាច្រើនដូចដែលបានរៀបរាប់ខាងលើស្រាប់ ។ វត្ថុទាំងនេះ យើងនឹងនាំគ្នាច្នៃឱ្យកើតជាផលិតកម្មយ៉ាងស័ក្តិសិទ្ធិ ។

**ពាក្យថា ពូជ និងគំនិតពុទ្ធសាសនា នៅក្នុងច្បាប់ក្រមង៉ុយ**

ទំព័រទី ៣០

| | | |
|---|---|---|
| ពាក្យចាស់លោកថា | ធ្វើស្រែចំការ | ស្តាប់មហាសង្រ្កាន្ត |
| ធ្វើម្តងខុសខាត | ធ្វើម្តងទៀតបាន | ធ្វើតាមប្រមាណ |
| | ប្រមើលទឹកភ្លៀង ។ | |
| រកប្តីប្រពន្ធ | ឱ្យគយឱ្យគន់ | រើសយករូបរាង |
| ពូជថ្លៃល្អមយក | ពូជចោកល្មមវាង | រូបល្អឬកល្បៀង |
| | នាងកុំប្រសព្វ ។ | |
| ជាតិស្រីនិងប្រុស | បើបានជាខុស | ខុសទាល់ចាស់ងាប់ |
| បើបានរូបល្អ | កម្រមានភ័ព្វ | មានខុសមិនគាប់ |
| | ដូច(ដូរ)ស្រែចំការ ។ | |

[94] - កិត្យានុភាព= កេរ្តិ៍ឈ្មោះល្បីល្បាញ មានគេកោតសរសើរ ។

ទំព័រ ៣៦

| | | |
|---|---|---|
| កូនចៅស្រីប្រុស | ចំណាំទុកចុះ | ទុកជាតម្រា |
| គួរយកតម្រាប់ | គួរស្តាប់ពុទ្ធដីកា | ព្រះអង្គទេសនា |
| | គាថាបួនបទ ។ | |
| រៀនគ្រាប់អ្នកប្រាជ្ញ | បើចង់ឈ្នះកាច | យកស្លូតសង្កត់ |
| ចង់ឈ្នះមនុស្សខឹង | ឱ្យប្រឹងខំអត់ | វាជេរវាហាត់ |
| | វាស្បថលែងខឹង ។ | |
| ចង់ឈ្នះអសុរោះ | ស្តីលេងឡេះឡោះ | កុំធ្វើជាដឹង |
| យើងស្តីត្រង់ណា | ឱ្យចាំត្រង់ហ្នឹង | ឃើញឬកយើងរឹង |
| | ខ្លាចយើងខាងក្រោយ ៕ | |



### ដោយ : ឌី ការ៉េត

••• ក្នុងកិច្ចការពារអត្ថប្រយោជន៍របស់ប្រជារាស្ត្រ និងប្រទេសជាតិ ។ នៅក្នុងរាជព្រះបាទសុរិយោវង្សទី១ *"ទោះជាមនុស្សដេកលក់ នៅក្នុងព្រៃម្នាក់ឯង ក៏មិនមានការព្រួយបារម្ភ ក្រែងចោរមកលួចទ្រព្យសម្បត្តិរបស់ខ្លួនដែរ"* ។

នៅក្នុងលទ្ធិសាសនានៃសម័យក្រោយអង្គរ ចំពោះចំណេះក្នុងវិទ្យាសាស្ត្របច្ចេកទេសធំៗ និងសិល្បសាស្ត្រផ្សេងៗ ស្ទើរតែទាំងអស់បានសាបរលាប ឬត្រូវគេបោះបង់ចោល ។ ព្រះសង្ឃពុទ្ធសាសនានាពេលនោះ ហាក់ដូចជាបិទទ្វារបង្អួចរបស់ខ្លួនជិតស្លុង លែងមានទំនាក់ទំនងជាមួយរដ្ឋបរទេសណាទាំងអស់ ។ ព្រះសង្ឃពុទ្ធសាសនា មិនត្រួតកិច្ចការមហាក្សត្រ និងមិនដឹកនាំរដ្ឋបាលជាតិផ្សេងៗទេ ហើយគ្រាន់តែធ្វើកិច្ចទូន្មានឱ្យមហាក្សត្រពិចារណាតាមគោលការណ៍សីលធម៌សុទ្ធសាធនៃក្បួន "ទសពិធរាជធម៌" ។ ប៉ុន្តែច្បាប់ត្រីនេតិ បានកំណត់ល្អិតល្អន់ អំពីគុណសម្បត្តិចាំបាច់នៃមហាក្សត្រ និងនាម៉ឺនមុខមន្ត្រី :

*បពិត្រមហារាជ ទ្រើសទ្រង់អំណាច អញ្ជើញស្តេចស្តាប់ ទំនឹមទំនង*
*នេះហោងជាច្បាប់ ទុកជាសណ្តាប់ នៃនជនជាតិ ។*
*នរអ្នកណា នឹងចូលទៅជា វររាជអាមាត្យ សេនាមន្ត្រី កវីជាអាទិ៍*
*រៀនច្បាប់ជាខ្នាត តែងទុករៀងទៅ ។(ច្បាប់ត្រីនេតិ)*

នៅទីបំផុត ក្នុងករណីដែលមហាក្សត្រមិន គោរពចំពោះច្បាប់រដ្ឋ និងករណីកិច្ចចាំបាច់ខាងលើនេះ អ្នកប្រាជ្ញខ្មែរយល់ថា ការរិះគន់និងការបះបោរនៃប្រជាជនជាការត្រឹមត្រូវ :

-ជាក្សត្រីយ៍ពុំរៀនធម៌ ពុំដោះសាជម្ងឺទ្រូង
រាស្ត្រទាស់នឹងចំកោង អាក់ចិត្តខឹងសត្វចោមរោម ។
-នឹងកើតក្តៅក្រហាយ ទុក្ខអន្តរាយភពផ្ទៃក្រោម រាស្ត្រផងនឹងខឹងចោមជ្រោមខ្នាត់ខ្នាយទីទៃណា ។ (ច្បាប់វិធូរបណ្ឌិត)

**សេចក្តីបញ្ចប់ "ខ្មែរអ្នកជា"**

កូនខ្មែរគ្រប់សម័យតែងតែប្រកាន់ប្រពៃណីរបស់ជាតិខ្លួនណាស់ ទោះបីមានការប្រែប្រួលក្នុងស្រុកខ្លួនម្តេចក្តី ពីព្រោះគេមានជំនឿយ៉ាងជ្រៅលើផលល្អនៃប្រពៃណីនោះ ។ ប្រជាជនខ្មែរមានជំនឿថាធម៌-ច្បាប់សំខាន់បំផុតបង្កបង្កើតសេចក្តីចំរើន និងឥទ្ធិពលខ្មែរ ។ ម្យ៉ាងទៀតលំដាប់ថ្នាក់ក្នុងសង្គមខ្មែរឈរលើកម្រិតនៃការពិសោធន៍របស់បុគ្គលម្នាក់ៗគឺលើអាយុ លើកកម្ពស់សីលធម៌ ឬលើសមត្ថភាពជាវិជ្ជមានរបស់បុគ្គលម្នាក់ៗ ។ ហេតុនេះ នៅក្នុងវិស័យនយោបាយខ្មែរតែងយល់ថា គេត្រូវប្រគល់អំណាចទៅឱ្យបុគ្គលដែលចេះដឹងច្បាស់អំពីធម៌-ច្បាប់ ហើយប្រតិបត្តិធម៌-ច្បាប់ គឺថាជាព្រះបាទធម្មិក ។

ប្រពៃណីខ្មែរមិនកើតមកពីទ្រឹស្តីសាសនាណាមួយទាំងស្រុងទេ ។ គឺជាគោលការណ៍ដែលកើតមកពីការពិសោធន៍ក្នុងជីវភាពជាក់ស្តែងចំនួនរាប់ពាន់ ឬរាប់ម៉ឺនរបស់ប្រជាជនខ្មែរ ការពិសោធន៍ធំបំផុតរបស់ប្រជាជនខ្មែរ គឺសង្គ្រាមរាប់ពាន់ឆ្នាំ ដែលបានកើតឡើងពីក្រៅស្រុកមកផង និងនៅក្នុងស្រុកខ្លួនផង ។ ជាច្រើនឆ្នាំមកហើយ ទ្វីបអាស៊ីជាទ្វីបដែលស្គាល់អំពើឃោរឃៅ និងសង្គ្រាមឥតមានស្រាកស្រាន្តយូរទេ តាំងពីប្រទេសឥណ្ឌា ដល់ប្រទេសចិន និងតាមកោះធំៗនៅសមុទ្រជិតខាង ។ ហេតុនេះ ជាច្រើនពាន់ឆ្នាំមកហើយ ស្រុកខ្មែរមិនមែនរស់ជា "កោះសន្តិភាព" ទេ ហើយការស្វែងរកឯកភាពជាតិ ដើម្បីបំបាត់សង្គ្រាមផ្ទៃក្នុង និងផ្តុំកម្លាំងជាតិជំនះសត្រូវពីក្រៅជាគោលដៅទី១ នៃការអប់រំជាប្រពៃណីរបស់ជនជាតិខ្មែរ ។ គេយល់ទៀតថា ឯកភាពជាតិនឹងកើតមានឡើងលុះត្រាតែកូនខ្មែរចេះគោរពគ្នា ទើបស្រឡាញ់គ្នាបាន, ចេះស្រឡាញ់ទើបជួយថែរក្សាគ្នា ជួយបណ្តុះបណ្តាលគ្នា (នេះគឺសាមគ្គីភាព), ចេះសាមគ្គីគ្នា ទើបតទល់និងសត្រូវបរទេសដល់មានជោគជ័យបាន ។

ប្រពៃណីនៃការប្រយុទ្ធតស៊ូ នៃប្រជាជនខ្មែរគឺ ការជំរុញឱ្យកូនខ្មែរឱ្យមានទស្សនៈវែងឆ្ងាយ និងឱ្យមានមហិច្ឆតាធំធេងសម្រាប់ជាតិ និងមាតុប្រទេសរបស់ខ្លួន ។ ខ្មែរមានពូជ ដែលជាពូកមានភាពថ្លៃថ្នូរ សុទ្ធសឹងជាអ្នកប្រកាន់សេរីភាពខ្លួនណាស់ គឺគេជា "ខ្មែរអ្នកជា" ហើយគេមិនអាចដាក់ខ្លួនជាមនុស្សខ្ញុំគេឡើយ ៕



# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

-ថ្ងៃ២កញ្ញា : សម្តេចសីហនុ មកដល់ហាណូយ

-ថ្ងៃ ៩ កញ្ញា : សម្តេច សីហនុ ត្រឡប់មកដល់ភ្នំពេញវិញ ព្រះអង្គដឹកនាំគណរដ្ឋមន្ត្រី ព្រះអង្គយាងចេញទៅសៀមរាប អង្គរ ដើម្បីបញ្ចុះធាតុព្រះមាតាកុសុមៈនារីរដ្ឋ តែត្រូវក្រុមខ្មែរក្រហមបដិសេធ ។

-ថ្ងៃ២០កញ្ញា : ក្រុមជនភៀសខ្លួនខ្មែរមកដល់ប៉ាំងកក ហើយប្តឹងទៅអគ្គលេខាធិការនៃអង្គការសហប្រជាជាតិ និងទៅ សម្តេច សីហនុ ស្តីអំពីអំពើឃោរឃៅទៅលើប្រជាពលរដ្ឋខ្លួនឯង ចាប់តាំងពីថ្ងៃ១៧ មេសា មក នៅថ្ងៃដដែលនោះ សម្តេច សីហនុ ចេញដំណើរទៅញូវយ៉ក ដើម្បីថ្លែងការណ៍នៃអង្គការសហប្រជាជាតិ បន្ទាប់មកព្រះអង្គបន្តដំណើរទៅកាន់ប្រទេសចំនួនប្រមាណ១០ រាប់ទាំងប្រទេសបារាំងផង នៅចុងបញ្ចប់ព្រះអង្គយាងទៅគង់នៅព្យុងយ៉ាង ប្រទេសកូរ៉េ ។

នៅញូវយ៉កព្រះអង្គបានសុំសិទ្ធិជ្រកកោននៅសហរដ្ឋអាមេរិក តែសហរដ្ឋអាមេរិកមិនទទួល ហើយជាមួយសហគមន៍ខ្មែរ នៅសហរដ្ឋអាមេរិក ព្រះអង្គប្រកាសសកម្មភាពបណ្តេញវៀតណាមពីកម្ពុជា ចាប់ពីពេលនោះតទៅ ។

ថ្ងៃ៣០កញ្ញា : ចាប់ខ្លួន ម៉ី ថូ ដែលជាសមាជិកកុម្មុយនិស្តចាស់ឆ្នាំជាងគេ ម៉ី ថូ គឺជាសកម្មជនម្នាក់ក្នុងចំណោម៧នាក់ ដែលបានចូលរួមក្នុងរដ្ឋប្រហារថ្ងៃទី៩ ខែសីហា ឆ្នាំ១៩៤៥ ទម្លាក់ ស្តេច សីហនុ តែត្រូវបរាជ័យ ហើយចាប់ខ្លួនដោយ សឺង ង៉ុកថាញ់ ជានាយករដ្ឋមន្ត្រី ។

-ថ្ងៃ ២៤-២៥ តុលា : ហ្វ្រង់ស្វា ប៉ុងសុន សរសេរនៅក្នុងកាសែត "ឡស្រូវ៉ា" អំពីនរកនៃការជម្លៀសខ្លួនដោយបង្ខំនៅកម្ពុជា, ជម្លៀសពលរដ្ឋចេញពីទីក្រុង, សម្លាប់រង្គាលលើរាជការនៃរបបមុនៗ, សម្លាប់ដោយគ្មានរើសមុខ, បំបែកកូនពីម្តាយឪពុក, របបសហករណ៍ទូទៅ, ធ្វើការដោយបង្ខំ, ការស្រេកឃ្លាន...។

-ថ្ងៃ៣១ តុលា ឆ្នាំ១៩៧៥ : កិច្ចព្រមព្រៀងកម្ពុជាប្រជាធិបតេយ្យ និងថៃឡង់ ទទួលស្គាល់ព្រំប្រទល់ដែនរួមនាពេលនោះ ។

-ខែវិច្ឆិកា : ក្រុមបុគ្គលិកទូតនៃរាជរដ្ឋាភិបាល GRUNK បានត្រូវកោះអញ្ជើញឱ្យចូលមាតុភូមិ មានតិចណាស់ដែលនៅរស់រានមានជីវិត ។

-ខែធ្នូ : ផ្ទុះអាវុធជាមួយនិងថៃនៅព្រំប្រទល់ដែន។

-ថ្ងៃ១៤-១៩ធ្នូ : មហាសន្និបាតលើកទី៣នៃបក្សកុម្មុយនិស្តខ្មែរ អនុម័តនូវធម្មនុញ្ញរបស់កម្ពុជាប្រជាធិបតេយ្យ។

-ថ្ងៃ៣១ធ្នូ : សម្តេច សីហនុ ត្រឡប់មកភ្នំពេញវិញ ។

**ឆ្នាំ១៩៧៦**

-៥មេសា : ការដាក់ឱ្យប្រើនូវរដ្ឋធម្មនុញ្ញកម្ពុជាប្រជាធិបតេយ្យ នូវចុងបញ្ចប់ និងចុងក្រោយនៃអង្គប្រជុំគណរដ្ឋមន្ត្រីក្រោមអធិបតីភាពនៃ សម្តេច សីហនុ ។ **(តទៅលេខក្រោយ)**



# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha



❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា

❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សីត .អេ.លី

❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖ Original Illuatration and Naration in Thai by Gunapayuta.

❖ Translation into English by A Lu.

❖ Coloring by Yann Fang Lee

❖ Translation into Khmer by Bhikkhu Kong Am.

**៥៩**- ទោះបីព្រះបាទសុទ្ធោទនៈ ទ្រង់បានជ្រើសរើសឱ្យមានក្រុមអ្នកកំដរល្អៗក្មេងៗសម្រាប់ព្រះរាជបុត្រ និងទ្រង់បានខិតខំព្យាយាមគ្រប់មធ្យោបាយ ដើម្បីរារាំងព្រះអង្គមិនឱ្យជួបអ្វីមួយដែលមិនជាទីសប្បាយក៏ដោយ ក៏ព្រះអង្គម្ចាស់ទ្រង់មិនសប្បាយព្រះទ័យដូចដែលព្រះបិតាសង្ឃឹមទុកនោះឡើយ ។ ព្រះសិទ្ធត្ថជាម្ចាស់ទ្រង់មានព្រះបំណងប្រាថ្នាយ៉ាងខ្លាំង ដើម្បីទតមើលវត្ថុល្អៗជាទីសប្បាយផ្សេងៗ ដទៃទៀតក្នុងលោកដែលមាននៅខាងក្រៅកំផែងនៃព្រះបរមរាជវាំង ។ ព្រះអង្គម្ចាស់មានព្រះបំណងចង់ដឹងថា តើជីវិតរស់នៅរបស់មនុស្សទាំងឡាយក្រៅពីពួកកូនស្តេច និងកូននាម៉ឺនមន្ត្រីធំៗ មានរបៀបរស់នៅយ៉ាងណា ។ ព្រះអង្គទ្រង់អង្វរទូលសុំព្រះបិតាម្តងជាពីរដងដោយទូលថា ព្រះអង្គទ្រង់មិនសប្បាយព្រះទ័យសោះឡើយ បើទ្រង់មិនបានយាងទៅទតលោកខាងក្រៅទេ ។

**៦០**- ដោយទ្រង់មិនអាចបដិសេធនៅការទូលសុំទទូចដដែលៗរបស់ព្រះរាជបុត្រ ដើម្បីយាងទៅទស្សនានៅខាងក្រៅព្រះបរមរាជវាំងទៀតបានព្រះបាទសុទ្ធោទនៈទ្រង់ក៏យល់ព្រមរាជានុញ្ញាត ។ ព្រះរាជាទ្រង់ប្រកាសថា នៅថ្ងៃដែលព្រះរាជបុត្រទ្រង់យាងទៅខាងក្រៅព្រះរាជវាំង គ្រប់ផ្ទះទាំងអស់ត្រូវបោសសម្អាត លាងថ្នាំ និងតុបតែងលម្អ ដោយដោតទង់ និងផ្កាភ្ញីឱ្យបានល្អ ។ នៅតាមដងផ្លូវមិនត្រូវឱ្យឃើញមានជនណាម្នាក់កំពុងធ្វើការឡើយ ហើយមនុស្សចាស់, មនុស្សឈឺ, មនុស្សខ្វិនខ្វាក់អន្ធការ និងមនុស្សកើតឃ្លង់ និងរោគផ្សេងៗ ត្រូវស្ថិតនៅតែក្នុងផ្ទះមិនត្រូវចេញក្រៅឡើយ រហូតដល់ព្រះរាជបុត្រយាងចូលទៅហួស ។ **(តទៅលេខក្រោយ)**

59- Although Suddahodana had a selected group of attendants for the prince and tried in every way to keep his sin from experiencing anything unpleasant in his life, the prince was not as happy as his father had hoped. The prince eagerly desired



to see other joyful things of the world, things that were beyond the palace walls. The prince also wanted to know what the life of the people, other than that of the sons of the king and their high officials, was like. Time and time again the prince pleaded with his father, informing him that he would never be happy unless he could see the outside world.

60- Unable to refuse the persistent demand of the prince to travel outside the palace, King Suddahodana finally consented.



He ordered that, on the day of the prince's outing, every house must be cleaned, painted and decorated with flags and flowers. Along the way no one was allowed to be seen working, and blind, sick old men and leprous persons had to stay home until the carriage of the prince had passed.

*(Continued Issue After)*

តមកទំព័រទី ០៣

## សម រង្ស៊ី ប្រើផែនទីក្លែងក្លាយ...

មិនដែលធ្វើផែនទីសម្រាប់ថា នេះជាព្រំប្រទល់ដែនខ្មែរ-យួនដែលអ្នកឯងទទួលស្គាល់ទេ គាត់ធ្វើហ្នឹងសម្រាប់ច្បាំង ដើម្បីកុំឱ្យច្បាំងហ្នឹងរាលដាលដល់ស្រុកខ្មែរ គាត់ត្រូវដាក់ឱ្យដឹងព្រំប្រទល់ដែនច្បាស់លាស់ដែរ ។ ប៉ុន្តែមិនត្រូវឱ្យមានភាពមិនច្បាស់លាស់អីចឹងទេ គឺកុំឱ្យតែទម្លាក់គ្រាប់បែកលើខ្មែរអីអាហ្នឹង ការច្បាំង គឺត្រឹមត្រូវរបស់គេ ។ ប៉ុន្តែផែនទីហ្នឹង គេមិនដែលទទួលស្គាល់ទេ ហើយអាមេរិកាំងក៏មិនដែលឱ្យអ្នកឯងទទួលស្គាល់ផែនទីហ្នឹងដែរ ។ ដូច្នោះហើយបានជាគណៈកម្មាធិការមិនព្រមទទួលស្គាល់សន្ធិសញ្ញានៅឆ្នាំ1985ទេ ពីព្រោះគេបង្ខំឱ្យយើងទទួលស្គាល់ផែនទីដែលយើងមិនទទួលស្គាល់សោះនោះ ។

**មាជ សុវណ្ណារ៉ា :** លោក ស៊ាន ប៉េងសែ ទាក់ទងទៅនឹងរឿងព្រំដែនហ្នឹង គឺស្របពេលដំណើរព្រះរាជទស្សនកិច្ចរបស់ព្រះមហាក្សត្រ គឺព្រះបាទនរោត្តម សីហមុនី ទៅកាន់ប្រទេសបារាំង តើក្នុងនាមលោកជាប្រធានគណៈកម្មាធិការកិច្ចការព្រំដែនកម្ពុជា ដែលមានទីស្នាក់ការនៅប្រទេសបារាំង ដូចជាខ្មែរនានានៅប្រទេសបារាំងមានផែនការណាដើម្បីចូលគាល់ព្រះមហាក្សត្រ ដើម្បីជម្រាបព្រះមហាក្សត្រទេ ព្រោះមហាក្សត្រជាស្តេចផែនដី រក្សាការពារបូរណភាពទឹកដី អធិបតេយ្យភាពអីហ្នឹង បាទ ! ?




**ស៊ាន ប៉េងសែ :** បាទ ! ខ្ញុំអត់មានគម្រោងអីទេ ពីព្រោះខ្ញុំដឹងថា ព្រះករុណាសព្វថ្ងៃហ្នឹង ដែលលោកចុះហត្ថលេខាក្នុងឆ្នាំ2005 គឺលោកយល់ទៅលើការដែលលោក ហ៊ុន សែន ចុះសន្ធិសញ្ញាបន្ថែមក្នុងឆ្នាំ 2005 នៅក្រុងហាណូយ គឺខែវិច្ឆិកាទៅចុះហត្ថលេខាជាមួយយួននៅក្រុងហាណូយ ហើយក្រោយមកគាត់ចេញពីនោះមកគាត់ដាក់សន្ធិសញ្ញាបន្ថែមឱ្យរដ្ឋសភាឱ្យព្រឹទ្ធសភា ហើយព្រះករុណាចុះហត្ថលេខា ។ ដូច្នោះគាត់ចុះហត្ថលេខាក្រោយលោក ហ៊ុន សែន ធ្វើសន្ធិសញ្ញាបន្ថែម ហើយគាត់ត្រឡប់ពីក្រុងហាណូយប្រាប់ថា ព្រះករុណាត្រូវតែចុះហត្ថលេខា បើមិនចុះហត្ថលេខាទេ គាត់នឹងយករាជអាណាចក្រហ្នឹងធ្វើជាសាធារណរដ្ឋទាំងអស់គ្នាអ្នកណាក៏គេដឹងដែរ ហើយព្រះករុណាបានធ្វើចុកហ្មាយមួយផ្ញើទៅរាស្ត្រពេលដែលគាត់ចុះហត្ថលេខាថា លោក ហ៊ុន សែន មកជួបគាត់នៅថ្ងៃនេះ ខែនេះ ហើយលោក ហ៊ុន សែន បានបញ្ជាក់ថា អត់បាត់ទឹកដីទេ ហើយមានតែគាត់ទេទទួលខុសត្រូវ ពីព្រោះគាត់ត្រូវបានរាស្ត្របោះឆ្នោតឱ្យហើយព្រឹទ្ធសភាអីហ្នឹង គឺថាចាញ់ដោយឆ្នោត ។ ដូច្នោះគាត់ត្រូវតែឱ្យព្រះករុណាចុះហត្ថលេខា ហើយព្រះករុណាមិនចុះហត្ថលេខា គាត់បានអញ្ជើញ ទ្រង់វណ្ណឫទ្ធិ ហើយមានក្រុមគ្រួសារ មានលោក សម្តេចច្រើននោះទៀតចូលទៅក្នុង បើខ្ញុំមិនច្រឡំទេ មានព្រះអង្គម្ចាស់សេរីវុឌ្ឍ. មានចក្រពង្ស ។ល។ និង ។ល។ គាត់ត្រូវតែសន្យាថា អត់មានបាត់បង់ទឹកដីអីនោះទេ ដូច្នោះលោកត្រូវចុះហត្ថលេខាទៅដើម្បីសន្តិភាព និងស្ថេរភាពនៃប្រទេសកម្ពុជា ។ ប៉ុន្តែចំពោះអ្នកណាខុស អ្នកណាត្រូវមិនអាចសន្និដ្ឋានបានទេ ពីព្រោះខ្ញុំមិនមែនជាអ្នកធ្វើពង្សាវតាហ្នឹង ។ ប៉ុន្តែរាស្ត្រហ្នឹងគាត់បានដឹងហើយ ខ្ញុំមិនបាច់និយាយទេ ពីថាអ្នកណាខុស អ្នកណាត្រូវ ។ ចំណែកខាងគណៈកម្មាធិការយើងតាំងពីដើមមកយើងមិនដែលទទួលស្គាល់សន្ធិ-សញ្ញាហ្នឹងទេ ពីព្រោះសន្ធិសញ្ញាហ្នឹងវាខុសច្បាប់ខុសពីសន្ធិសញ្ញាក្រុងប៉ារីសផង ខុសពីរដ្ឋធម្មនុញ្ញខ្មែរយើងផង ។ ហើយដែលខ្លាំងបំផុតពេលដែលព្រះករុណា សីហនុ កាលលោកនៅសោយរាជ្យនៅឡើយ ព្រះអង្គបានប្រាប់គណៈកម្មាធិការយើងទៅគាល់ព្រះអង្គ នៅក្នុងឆ្នាំ2002 ប្រាប់ថា សន្ធិសញ្ញាបន្ថែមដូចដែលខ្ញុំបានរៀបរាប់អម្បាញ់មិញហ្នឹង បន្ទាប់មកលោកមិនត្រូវចុះហត្ថលេខាទេ បើសិនណាមានវិបត្តិនៅប្រទេសខ្មែរយ៉ាងណា ក្តីក៏មិនចុះហត្ថលេខាដែរ ខ្ញុំមិននឹកស្មានថា ព្រះករុណា សីហមុនី ហ្នឹងមិនចុះហត្ថលេខា ដូចព្រះករុណា សីហនុ ដែរ ប៉ុន្តែពេលដែលចុះហត្ថលេខាអីចឹងទៅ ខ្ញុំក៏មានការភ្ញាក់ខ្លួនព្រើតអីចឹងដែរ ។ ហើយខ្ញុំមិននឹកស្មានថា សន្ធិសញ្ញានៅក្រុងប៉ារីស គេទុកលទ្ធភាពឱ្យយើងចេញរួចពីខ្ញុំកញ្ជះគេ យើងចង់ទៅធ្វើជាខ្ញុំកញ្ជះគេដូចសព្វថ្ងៃហ្នឹង ។ ហើយខ្ញុំសន្យាថា បាត់ទឹកដីច្រើនណាស់ទាំងសមុទ្រសមុទ្រហ្នឹង គូសផែនទីអន្តរជាតិរួចហើយខ្ញុំឃើញហើយបាត់ 30ពាន់គីឡូម៉ែត្រការ៉េខាងសៀម 30 ពាន់គីឡូម៉ែត្រការ៉េខាងយួន ។

**មាជ សុវណ្ណារ៉ា :** បាទ ! លោក ស៊ាន ប៉េងសែ ទាក់ទងទៅនឹងព្រំដែនចេញពីតម្រុយបង្គោលព្រំដែនលេខ185 ដែលលោក សម រង្ស៊ី បានដក កាលពីថ្ងៃទី 25 ខែតុលា ឆ្នាំ2009 នោះ គឺគណបក្សប្រឆាំងរបស់លោកបានដាក់ស្នើសមាជិកសភានៃគណបក្សប្រឆាំង 6នាក់ បានដាក់ស្នើចំនួន6ចំណុចទៅលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដើម្បីឱ្យឆ្លើយបំភ្លឺទាក់ទងទៅនឹងបញ្ហាព្រំដែន ។ ហើយនៅក្នុងចំណុចនឹងឃើញថាចំណុចមួយនឹងបាននិយាយថា ចុះមូលហេតុអ្វីក្រោយពីដកតម្រុយបង្គោល 185ហើយស្រាប់តែបានប៉ុន្មានថ្ងៃដែលលោក សម រង្ស៊ី ដកហ្នឹង រដ្ឋាភិបាលយួនគេបានមកដកយកតម្រុយបង្គោលព្រំលេខ184, 186, 187 ទៅបាត់ ។ តើបញ្ហាហ្នឹងវាយ៉ាងម៉េចដែរ ?

**ស៊ាន ប៉េងសែ :** បាទ ! អាហ្នឹងដូចដែលលោកបានរៀបរាប់មក គឺត្រឹមត្រូវអស់ហើយ ចម្លើយនៅនឹងស្រាប់ហើយ ហេតុអ្វីបានជាគាត់មិនប្រាប់គេ ហេតុអ្វីបានដកតម្រុយនេះទៅវិញ បញ្ហាហ្នឹងយើង

(តទៅទំព័រទី ១៨)

# ហោរាសាស្ត្រប្រចាំ ថ្ងៃទី១២_២៥មីនា.២០១០

**ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការប៉ងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ប្រកបដោយសេចក្ដីសុខក្សេមក្សាន្ត ៕

**ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិត ប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបការងារអ្វីក៏អាចទទួលបានផលសម្រេចតាមការប៉ងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អីនល្អណាស់ ៕

**ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ មុជមិនជ្រៅទៅមិនឆ្ងាយ តែបើលោកអ្នករកស៊ីនាយអាយនៅក្បែរៗ គឺអាចរកផលចំណូលហូរចូលច្រើនគ្រាន់បើ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មិនសូវយល់ចិត្តថ្លើមគ្នាទេ ៕

**ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ពិតមែនតែបានជួបនិងឱកាសល្អខ្លះៗក្ដី ក៏លោកអ្នកមិនត្រូវធ្វើឲ្យមានការធ្វេសប្រហែសដែរ ព្រោះវាអាចនាំឲ្យបាត់បង់ទ្រព្យ ។ ចំពោះគូស្នេហ៍ ក្នុង រយៈពេលនេះមានការយល់អធ្យាស្រ័យគ្នាធម្មតា ៕

**ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះលោកអ្នកត្រូវប្រយ័ត្នប្រយែងក្រែងមានបងប្អូនញាតិមិត្តនាំរឿងក្ដៅក្រហាយមកឲ្យអាចនាំឲ្យមានអំពល់ទុក្ខដាក់ខ្លួនព្រមទាំងអាចបង់ខាតទ្រព្យច្រើនទៀតផង ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕

**ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្ដីក៏លោកអ្នកអាចបោះជំហានទៅមុខដោយសន្សឹមៗបានដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ គឺអាចគិតគូរឿងអាពាហ៍ពិពាហ៍បាន ៕



**ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលទោះលោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្ដី ក៏មិនបញ្ហាអ្វីដែរ ព្រោះលោកអ្នកយកប្រៀបឈ្នះជាប់ជានិច្ច ចំពោះកម្លោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នា និងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕



**ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ដោយទំនាយទាយថាអាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ មានផលប៉ះទង្គិចគ្នាខ្លះ ៕



**ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយចូររៀបចំគម្រោងផែនការជាមុន ទើបពុំមានការថ្លោះធ្លោយ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



**ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសក្នុងការទូទាត់បញ្ជីប្រាក់កាសផ្សេងៗប្រយ័ត្នមានការភ្លាំងភ្លាត់តែបន្តិចអាចខាតបង់ទ្រព្យច្រើន ដែលមិនអាចគណនាបានឡើយ ។ ចំពោះគូស្វាមីភរិយាប្រយ័ត្នមានគេអុជអាលឲ្យបែកបាក់គ្នា ៕



**ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកជាមនុស្សពូកែខាងសម្ដីវោហារ ទោះជាបាននិយាយស្ដីច្រើនបន្តិចក្ដី ក៏មិនឥតប្រយោជន៍ដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕



**ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើងមានការមមាញឹកនិងហត់នឿយច្រើនក្ដី តែភោគផលកម្រៃហូរចូលបានតិចតួចស្ដួចស្ដើងប៉ុណ្ណោះ ។ ចំពោះស្នេហាក្នុងរយៈពេលនេះ ប្រយ័ត្នមានអ្នកទីពាចូលជ្រៀតជ្រែក ៕

## ច្រមុះមិនកោងស្អាត គួរធ្វើបែបណា

•••ចំពោះសុភាពស្ត្រីដែលរកក្ដោងច្រមុះស្ទើរតែគ្មានសោះនោះ ឬមានដែរ តែមិនកោងស្អាត ហើយកំពុងតែស្វែងរកវិធីនោះ សូមឈប់បារម្ភតទៅទៀតទៅ ព្រោះពេលនេះយើងមានចម្លើយមកណែនាំហើយ ។

វិធីនេះអាចធ្វើឲ្យក្ដោងច្រមុះកោងស្អាត ដោយមិនចាំបាច់ទៅពឹងគ្រូពេទ្យឲ្យឈឺសាច់ ឬអស់មាសប្រាក់លុយកាក់នោះឡើយ ព្រោះថា វិធីដែលជួយធ្វើឲ្យខ្លួនឯងបានស្អាតដោយដៃឯងក៏មានដែរ ។ ជាវិធីដែលមិនចាំបាច់ទៅកែកុន តែប្រើវិធីកែសម្ផស្សបូលមកជួយដោយវិធីនេះ អាចជួយធ្វើឲ្យច្រមុះអ្នកកាន់តែកោងស្អាតជាងមុនបាន ។

វិធីនេះគឺនៅពេលណាអ្នកតុបតែងមុខមាត់ អ្នកគួរប្រើអាយឆេដូពណ៌ត្នោតបែបស្រាល។ ផាត់នៅគល់ចិញ្ចើមឲ្យក្រាស់បន្តិច ។ ក៏ប៉ុន្តែ ចាប់ផ្ដើមស្រាលដៃជាស្រមោល។ បន្ទាប់មកផាត់ដេញចុះពីចិញ្ចើមចុះទៅក្បែរច្រមុះសងខាង និងកៀសឲ្យចូលជាមួយនិងស្លាបច្រមុះ ។ អ្នកគួរធ្វើបែបនេះទាំងសងខាងច្រមុះហើយព្យាយាមសង្កេតមើលធ្វើយ៉ាងណាឲ្យស័ក្ដិសមផងដែរ ។ សំរាប់អ្នកដែលមានក្ដោងច្រមុះរាងវែងមិនចាំបាច់ផាត់ដេញរហូតទៅដល់ស្លាបច្រមុះក៏បានដែរ តែណែនាំឲ្យផាត់កាត់ចុងច្រមុះជំនួសវិញ ដោយលើកនេះហ៊ានធានាថា ក្ដោងច្រមុះរបស់អ្នក និងបានស្រស់ស្អាតតាមបែបធម្មជាតិបំផុត ៕

## ធ្វើយ៉ាងណាទើបស្បែករលីងស្អាត

ដើម្បីឲ្យផ្ទៃមុខស្រស់ស្អាត ទោះបីជាត្រូវឲ្យសុភាពនារីទៅស្វែងរកគ្រូពេទ្យពូកែៗនៅទីឆ្ងាយបែបណាក្ដី ក៏យើងមានជំនឿថាពួកនាងមិនរារែកនោះដែរ ។ នោះក៏ព្រោះថា រឿងសម្ផស្សនេះវាមានតម្លៃស្មើរតែស្មើជីវិតរបស់នាងទៅហើយ ។

ក្រៅពីការលាបក្រែម ឡេបំប៉នចេញនោះ ថ្ងៃនេះយើងមានរូបមន្តម៉ាស្សាផ្ទៃមុខមកផ្ញើជូនដូចខាងក្រោមនេះ ៖

**– មុខឡើងស្អាតដោយមើមការ៉ុត :**

ត្រៀមមើមការ៉ុតមួយត់ និងទឹកក្រូចឆ្មា រួចយកមកលាយបញ្ចូលគ្នាឲ្យសព្វ ។ បន្ទាប់មកយកវាមកបិទបំពកទុកនៅលើស្បែកមុខឲ្យបានសព្វ ទុកចោលមួយស្របក់ សឹមប្រើទឹកស្អាតលាងជំរះចេញ ។ ការធ្វើបែបនេះ ជាប់ជាប្រចាំវានិងជួយកាត់បន្ថយស្នាមស្បែកគគ្រើមបាន ។



**– បង្កើតភាពស្រស់ថ្លាដោយត្រសក់ :**

នៅក្នុងបន្លែត្រសក់មានអង់ស៊ីមម្យ៉ាង ឈ្មោះគ្រីស៊ីនដែលអាចជួយលុបបំបាត់ស្បែកគគ្រើមអស់បាន ធ្វើឲ្យស្រស់ថ្លា និងខ្ចីទន់ល្មើយឡើងវិញ ។ សំរាប់វិធី គឺហាន់ផ្លែត្រសក់ជាបន្ទះស្ដើងៗរួចមកបិទនៅលើផ្ទៃមុខទុកចោលមួយស្របក់ទើបបកចេញ ។ ដំណាក់កាលបន្តមកគឺលាបដោយឡេបំប៉នស្បែកទុកជាការស្រេច ។

**– រាបរលោងដោយផ្លែប៉េងប៉ោះ :**

យកផ្លែប៉េងប៉ោះមកបកសំបកចេញឲ្យស្អាតរួចឈ្លីសាច់ខាងក្នុងឲ្យល្អិតបន្ទាប់មកយកវាទៅលាយជាមួយទឹកដោះគោជូរក្ករឲ្យសព្វចូលគ្នាយើង និងបានទឹកល្បាយខាប់មួយ ។ រួចហើយយកមកបិទបំពកនៅលើផ្ទៃមុខឲ្យសព្វ ទុកចោលពី១០–១៥នាទី សឹមប្រើទឹកស្អាត លាងជំរះវាចេញ ។ ប្រសិនបើធ្វើបែបនេះ? ជាប់ជាប្រចាំនោះស្បែកនិងបានរលោងស្អាតជាក់ជាមិនខាន ៕



សោភ័ណភាព

## លុបបំបាត់ស្នាមជ្រីវជ្រួញ នៅលើផ្ទៃមុខ




•បញ្ហាជ្រីវជ្រួញនេះវាច្រើនកើតមានទៅលើអ្នកដែលមានស្ថានភាពស្បែកក្រៀមស្ងួតនោះ ក៏ដោយសារមានមូលហេតុមកពីខ្វះវីតាមីន និងសារជាតិទឹកសំរាប់បំប៉នចិញ្ចឹមស្បែកឲ្យបានគ្រប់គ្រាន់ ។ ផលអាក្រក់ដែលទទួលបានគឺ ស្បែកស្ងួតលេចចេញនូវស្នាមជ្រីវជ្រួញចាស់មុនវ័យដ៏សមគួរនោះឯង ។

ក៏ប៉ុន្តែមិនថ្វីនោះទេ ប្រសិនបើអ្នកកំពុងតែប្រឈមនិងបញ្ហាបែបខាងលើនេះយើងមានវិធីដែលអាចកំចាត់បញ្ហាដូចខាងលើនេះមកជំរាបជូនដូចខាងក្រោមនេះ៖ – លាបឡេបំប៉នស្បែកនៅពេលព្រឹក មុនពេលគេងឲ្យបានជាប់ជាប្រចាំ ។

– ចៀសវាងកំដៅថ្ងៃខ្លាំង

– ទទួលទានបន្លែ ផ្លែឈើ និងទឹកក្នុងមួយថ្ងៃ ៨ កែវ–១០កែវរាល់ថ្ងៃ ។

– ហាត់ប្រាណជាប់ជាប្រចាំ ៕

តមកទំព័រទី ១៦

# សម រង្ស៊ី ប្រើផែនទីក្លែងក្លាយ...

យល់ហើយ មិនបាច់ខ្ញុំនិយាយ គឺ 2និង2 គឺ4 ហើយ គឺថាគាត់ដកតម្រុយហ្នឹងវាខុស ។ ដល់ផ្អើលអ៊ីចឹងទៅ ចូលមកចង់លួចស្រុកគេអាហ្នឹងតាមដែលខ្ញុំយល់ទេ ។ ស្រុកគេ បើគេឃើញអ្នកលួចគាត់រត់ចេញទៅ គឺថា យកដៃលូកហោប៉ៅយកលុយគេ ហើយគេចាប់ដៃបាន គាត់ភ័យក៏ដកដៃចេញវិញទៅ ។ ដូចលោក សម រង្ស៊ី លោកបានមានប្រសាសន៍រួចមកហើយអំពីបញ្ហាហ្នឹង ខ្ញុំមិនចាំបាច់ឆ្លើយជំនួសគាត់ទេបាទ !

**មាជ សុវណ្ណារ៉ា :** តើក្នុងនាមផ្លូវនយោបាយវិញ យើងគិតថា ការប្រកួតប្រជែងក្នុងការបោះឆ្នោត គណបក្សមួយតែងចង់ដណ្តើម ប្រជាប្រិយភាពចង់ឈ្នះគណបក្សមួយផ្សេងទៀត ដោយយកហេតុផល ឬធ្វើអ្វីឱ្យតែម្ខាងៗឈ្នះ ។ ប៉ុន្តែទាក់ទងទៅនឹងបញ្ហាលោក សម រង្ស៊ី ដែលជាប្រធានគណបក្សប្រឆាំងធំក្នុងប្រទេសកម្ពុជា តើលោកមើលឃើញថា នេះជាសំពាធនយោបាយដែលគេដាក់ទំងន់មកទៅលើលោក សម រង្ស៊ី ដើម្បីបញ្ចប់ជីវិតនយោបាយលោក សម រង្ស៊ី តើលោកមើលឃើញយ៉ាងម៉េច ដែរពីបញ្ហាស្ថានការនយោបាយនៅស្រុកខ្មែរ គឺមុនពេលបោះឆ្នោតចូលមកដល់ ?

**ស៊ាន ប៉េងសែ :** បាទ ! សំណួរហ្នឹងល្អជាងគេ ពីព្រោះថា ក្នុងការធ្វើនយោបាយវាប្រើនយោបាយហើយ ។ អ៊ីចឹងហើយបានជាខ្ញុំមិនចូលទៅក្នុងគណបក្សហ្នឹង ហើយបើខ្ញុំស្រលាញ់អ្នកណាតាម Program ខ្ញុំបោះឱ្យអ្នកនោះប្រសិនបើខ្ញុំអាចបោះឱ្យបាន ។ ប៉ុន្តែលោក សម រង្ស៊ី បានធ្វើចុងក្រោយហ្នឹង មិនមែនគាត់ជាអ្នកបង្កើតឯណាបញ្ហានេះយើងធ្វើជាសំណួរទៅនេះជារឿងចៃដន្យតើ ។ ហើយតាំងពីដើមមកគាត់មិនដែលទទួលស្គាល់សន្ធិសញ្ញាខុសច្បាប់ហ្នឹងទេ នេះខ្ញុំនិយាយអ៊ីចឹង ។ ហើយអាគំនិតហ្នឹងវាត្រូវតាមគណៈកម្មាធិការយើង ហើយបើខ្ញុំជាអ្នកបោះឆ្នោត ហើយបើមិនបោះឆ្នោតឱ្យអ្នកណា គឺខ្ញុំប្រាកដជាបោះឆ្នោតឱ្យលោក សម រង្ស៊ី ហើយ ពីព្រោះបើមានគំនិតដូចខ្ញុំ ។ នេះពិតប្រាកដជានយោបាយហើយ ប៉ុន្តែបើ



លោក ស៊ាន ប៉េងសែ

ប្រជារាស្ត្រហ្នឹងតាំងពីដើមមករឿងព្រំប្រទល់ដែន ដូចគ្នាទាំងអស់ហើយ សព្វថ្ងៃខ្មែរវេទនាយ៉ាងម៉េច គឺថាការពារបូរណភាពទឹកដីហ្នឹង គាត់ការពារជាចំបងមុននឹងបានអ្វីទាំងអស់ ។ ប៉ុន្តែរឿងការបោះឆ្នោត ហេតុអ្វីបានជាថា ការពារបូរណភាពទឹកដី ហេតុអ្វីក៏បោះឆ្នោតឱ្យគណបក្សណាមួយដែលមិនការពារទឹកដី ។ ការបោះឆ្នោតវាមានជំហានទី2ទៀត គឺការបោះឆ្នោតមិនត្រឹមត្រូវទេ មិនមែនការបោះដូចនៅអាមេរិកាំង ដូចបារាំងអ៊ីចឹងទេ ។ ដូច្នោះហើយគាត់ស្រឡាញ់គណបក្សនេះ ប៉ុន្តែគាត់ខ្លាចគណបក្សនោះគណបក្សកាន់អំណាច ។ ដូច្នេះការបោះឆ្នោតវាមិនឆ្លុះបញ្ចាំងនៃគំនិតរបស់គាត់ទេ ដូចលោក សម រង្ស៊ី គាត់ចាញ់ប៉ុណ្ណឹង ប្រសិនណាជាការបោះឆ្នោតត្រឹមត្រូវប្រហែលជាគាត់ពិតជាឈ្នះ ។ ដូចនៅស្រុកបារាំងក៏អ៊ីចឹងដែរ ពួកកុម្មុយនិស្តគេមានល្បិចកលរបស់គេ ប៉ុន្តែមិនមែនឈ្នះរហូតដល់90%នោះ ទេនៅក្នុងស្រុកដែលស៊ីវិល័យហ្នឹង ដូចជាបារាំងជាដើម ពីព្រោះបារាំងជាប្រទេសខាងកុម្មុយនិស្ត មិនដែលហួសពី 0.3, 0.4, 0.5នោះទេ ។ ដូច្នេះគេ មានអ៊ីចឹងហើយ ហើយគេបោះត្រឹមត្រូវអ៊ីចឹងហើយ និងមានល្បិចពីកុម្មុយនិស្ត ហើយគាត់គេចមិនរួចពី5%នឹងទេបាទ!។

**មាជ សុវណ្ណារ៉ា :** បាទ ! សូមអរគុណលោក ស៊ាន ប៉េងសែដែលជាប្រធានគណៈកម្មាធិការកិច្ចការព្រំដែនកម្ពុជាដែលមានទីស្នាក់ការនៅប្រទេសបារាំង ហើយលោកក៏ជាអតីតរដ្ឋមន្ត្រីនៃក្រសួងឧស្សាហកម្មរ៉ែ និងថាមពលក្នុងសម័យនៃសាធារណរដ្ឋ ដែលបានផ្តល់នូវពេលវេលាក្នុងកិច្ចសម្ភាសន៍ជាមួយកាសែតខ្មែរប៉ុស្តិ៍សម្រាប់មិត្តអ្នកអាន ។

**ស៊ាន ប៉េងសែ :** សូមអរគុណ បាទ ! ៕



## សំនួរសម្រាប់ឆ្លើយមានរង្វាន់ថ្មី

សំនួរដែលត្រូវឆ្លើយឱ្យបានមុនថ្ងៃទី២៣ ខែមីនា ឆ្នាំ២០១០ :

**- "ទឹកស្ទឹងហូរមិនត្រឡប់ ឬ River never return" ជាបទចម្រៀងសាសងផ្តោះផ្តងស្នេហាគ្រប់កាលសម័យ ។**

**១- ទឹកស្ទឹង ឬទន្លេទាំងអស់នៅកម្ពុជាហូរមិនដែលត្រឡប់ តើពិត ឬមិនពិត?**

**២- ហេតុអ្វី ?**

- អ្នកដែលឆ្លើយត្រូវមុនគេនឹងទទួលបានរង្វាន់ពី "ភោជនីយដ្ឋាន ការី " ហើយផ្សាយឈ្មោះនៅលើទំព័រកាសែតខ្មែរប៉ុស្តិ៍លេខ ៥៦ ។